(Munafiq in Islam, Part II)

~munāfiq មេដឹកនាំធំរបស់ពួកគេនៅសម័យរ៉សូលុលឡោះមានឈ្មោះថា

~munāfiq គឺកខ្វក់ ឬកខ្វក់ទាំងចិត្ត និងកាយរបស់ពួកគេ
(al-Quran 9:95)

~munāfiq គឺជាជនដែលបានប្រឆាំងបន្ទាប់ពីមានជំនឿរួច
(al-Quran 9:66)

~munāfiq គឺជាពួកដែលប្រឆាំងវិញបន្ទាប់ពីការចូល សាសនាអ៊ីស្លាមរួច
(al-Quran 9:74)

~munāfiq គឺជាមនុស្សរឹងរូស ដោយពួកគេមិនព្រមបោះបង់ការប្រព្រឹត្តរបស់ពួកគេនោះទេ
(al-Quran 9:101)

Caption

~munāfiq គឺជាជនដែលចង់បានមួយចំណែកនូវអ្វីដែល គេបានបរិច្ចាគ ដូចនេះពួកគេខឹងនៅពេលមិនបានមួយចំណែកនៃការបរិច្ចាគ តែសប្បាយរីករាយនៅពេលបានមួយចំណែកអំពីវា
(al-Quran 9:58)

~munāfiq គឺជាជនមិនយល់អ្វីឡើយ ដោយសារអល់ឡោះ ជាម្ចាស់បានបោះត្រាភ្ជិតលើចិត្តរបស់ពួកគេ ដោយសា
ពួកគេមិនចូលរួមប្រយុទ្ធជាមួយអីស្លាមដោយក្តីរីករាយ
(al-Quran 9:87)

~munāfiq គឺជាជនធ្វើបាបណាប្ពី ដោយសារគាត់ជាអ្នក ស្ដាប់ និងជឿអ្វីៗគ្រប់បែបយ៉ាង ដូចនេះពួកគេនឹងទទួល ទារុណកម្មយ៉ាងឈឺចាប់។

(al-Quran 9:61)

~munāfiq គឺជាពួក faasiq (ល្មើសច្បាប់) ហើយអល់ឡោះមិនចង្អុលបង្ហាញទេចំពោះក្រុម faasiq

(al-Quran 9:67, 80)

~munāfiq គឺជាជនបង្ខូចកេរ្តិ៍ឈ្មោះអ្នកដទៃ ឬអ្នកមានជំនឿដូចជាខណៈដែលពួកគេកំពុងបរិច្ចាគ និងបរិច្ចាគតិចតួចទៅតាមលទ្ធភាព

(al-Quran 9:79)

~munāfiq គឺជាជនកំណាញ់ និងមិនបរិច្ចាគ បន្ទាប់ពីអល់ឡោះជាម្ចាស់បានផ្ដល់ឲ្យពួកគេនូវអ្វីដែលពួកគេបានស្នើសុំរួច

(al-Quran 9:75-76)

Caption

~munāfiq គឺជាជនបែរចេញ ឬបដិសេធក្នុងនាមជាពួក ដែលប្រឆាំង

(al-Quran 9:75-76)

~munāfiq គឺជាជនស្លាប់ទៅក្នុងលក្ខណៈមួយ kāfir

(al-Quran 9:125)

~munāfiq គឺជាជនដែលកាន់តែគ្មានជំនឿលើភាពគ្មាន ជំនឿថែមទៀត ដោយសាចិត្តរបស់ពួកគេមានជំងឺពុតត្បុត នៅពេលណាអាយ៉ាត់ៗបានទៅដល់ពួកគេ

(al-Quran 9:125)

~munāfiq គឺជាមនុស្សចចេសរឹងរូសមិនព្រមសារភាព កំហុស និងមិនទទួលយកការក្រើនរំលឹកផងដែរ ទោះបីជាអល់ឡោះជាម្ចាស់បានសាកល្បងពួកគេក៏ដោយ

(al-Quran 9:126)

~munāfiq គឺជាជនមិនសារភាពកំហុសរបស់ពួកគេ

(al-Quran 9:126)

~munāfiq គឺជាជនមិនទទួលយកការក្រើនរំលឹកនោះទេ ទោះបីមានការសាកល្បងក៏ដោយ

(al-Quran 9:126)

~munāfiq គឺជាក្រុមប្រព្រឹត្តបាបកម្ម ដូចនេះបើអល់ឡោះជាម្ចាស់លើកលែងទោសក្រុមមួយ ក៏នឹងធ្វើទារុណកម្មក្រុមផ្សេងទៀតដែរក្នុងចំណោមពួកគេ

(al-Quran 9:66)

~munāfiq គឺជាក្រុមដែលខ្លាច ដោយពួកគេស្ទើរតែរត់គេចប្រសិនបើពួកគេមានកន្លែងការពារខ្លួន ឬមានរូងភ្នំ ឬមាន រូងដី ពួកគេពិតជាទៅរកទីនោះដោយប្រញាប់ប្រញាល់ជាមិនខាន។

(al-Quran 9:56-57)

Caption

~munāfiq គឺជាក្រុមដែលគ្មានការយល់ដឹង ដូចនេះ
អល់ឡោះជាម្ចាស់នឹងបង្វែរចិត្តរបស់ពួកគេដោយសារតែពួកគេបានចាកចេញនៅពេលអាយ៉ាត់ ឬស៊ូរ៉ោះណាមួយទៅដល់ពួកគេ

(al-Quran 9:127)

~munāfiq គឺពួកគេភ្លេចអល់ឡោះជាម្ចាស់ ដូចនេះអល់ឡោះក៏ភ្លេចពួកគេវិញដែរ

(al-Quran 9:67)

~munāfiq ប្រុស និង munāfiq ស្រី គឺដូចគ្នាដោយ
ពួកគេប្រើ គ្នាឱ្យប្រព្រឹត្តអំពើអាក្រក់និងហាមឃាត់គ្នាពីការសាងអំពើល្អ ហើយ ពួកគេក្តាប់ដៃរបស់ពួកគេកំណាញ់

(al-Quran 9:67)

~munāfiq កន្លែងវិលត្រឡប់របស់ពួកគេ គឺអាក្រក់បំផុត

(al-Quran 9:73)

~munāfiq ទៅសឡាតដោយខ្ជិលច្រអូស

(al-Quran 9:54)

~munāfiq តែងតែបរាជ័យ

(al-Quran 9:74)

~munāfiq ធំមួយចំនួនជាពួកអារ៉ាប់ជនបទ (ٱلْأَعْرَابُ) ហើយក៏ជា kāfir ខ្លាំងជាងគេផងដែរ

(al-Quran 9:97)

~munāfiq នៅពេលពួកគេចំអក និងលេងសើចចំពោះអាយ៉ាត់ៗ និងអ្នកនាំសារព្រះ ពួកគេនិងនិយាយថាតាមពិត ពួកយើងគ្រាន់តែចំអកនិងលេងសើចប៉ុណ្ណោះ។

(al-Quran 9:65)

~munāfiq នៅពេលពួកគេបានបែរចេញអំពីអាយ៉ាត់ៗ និងអ្នកនាំសារនោះចូរនិយាយទៅកាន់ពួកគេថា៖ អល់ឡោះតែមួយគត់គឺគ្រប់ គ្រាន់សម្រាប់ខ្ញុំ។ គ្មានម្ចាស់ណាដែលត្រូវគេគោរពសក្ការៈដ៏ពិត ប្រាកដក្រៅពីទ្រង់ឡើយ។ ចំពោះទ្រង់តែមួយគត់ដែលខ្ញុំបាន ប្រគល់ការទុកចិត្ត ហើយទ្រង់គឺជាម្ចាស់នៃអារ៉ស្ហដ៏ធំធេង

Caption

فَقُلْ حَسْبِيَ اللَّهُ لَا إِلَٰهَ إِلَّا هُوَ ۖ عَلَيْهِ تَوَكَّلْتُ ۖ وَهُوَ رَبُّ الْعَرْشِ الْعَظِيمِ

(al-Quran 9:127)

~munāfiq មានទីលំនៅឯ Jahannam

(al-Quran 9:73)

~munāfiq មានពួកអារ៉ាប់ជនបទ (ٱلْأَعْرَابُ) ជាពួក ពុតត្បុតជាងគេ

(al-Quran 9:97)

~munāfiq អ្វីដែលជាការតបស្នងសំរាប់ការប្រព្រឹត្តរបស់ ពួកគេមានតែនរក Jahannam ដែលផ្ទុយអំពីអ្នកមានជំនឿដែលការតបស្នងការប្រព្រឹត្ត គឺឋានសួគ៌
(al-Quran 9:95)

~munāfiq រង់ចាំមើលអំពីគ្រោះថ្នាក់ដែលនឹងកើតឡើងទៅលើអ៊ីស្លាម តែគ្រោះអាក្រក់នោះកើតមានចំពោះពួកគេទៅវិញទេ។
(al-Quran 9:98)

~munāfiq នឹងស្លាប់ក្នុងលក្ខណះមួយជា faasiq (ប្រព្រឹត្តល្មើស)
(al-Quran 9:84)

~munāfiq នឹងរីករាយនៅពេលមិនបានចូលរួមប្រយុទ្ធ
(al-Quran 9:87)

~munāfiq នឹងមានអំពើអាក្រក់ធ្លាក់ទៅលើពួកគេដោយសារបាបកម្មនៃការគិតអាក្រក់ចំពោះអល់ឡោះជាម្ចាស់
(al-Quran 48:6)

Caption

~munāfiq នឹងត្រូវអល់ឡោះជាម្ចាស់ដាក់ទណ្ឌកម្មពួកគេចំនួនពីរដង ក្រោយមកពួកគេនឹង ត្រូវគេបញ្ជូនទៅកាន់ទារុណកម្មដ៏ធ្ងន់ធ្ងរ ដូចជាពួក munāfiq នៃប្រជាជនក្រុង Madina ជាដើម
(al-Quran 9:101)

~munāfiq នឹងត្រូវអល់ឡោះជាម្ចាស់សាកល្បងពួកគេ ក្នុងមួយឆ្នាំចំនួន 1 ឬ 2 ដង
(al-Quran 9:126)

~munāfiq នឹងត្រូវអល់ឡោះជាម្ចាស់បង្វែរចិត្តរបស់ពួកគេដោយសារតែពួកគេជាក្រុមដែលគ្មានការយល់ដឹង។
(al-Quran 9:127)

~munāfiq នឹងបែរចេញអំពីអាយ៉ាត់ និងអ្នកនាំសារបន្ទាប់ពីបានទៅដល់ពួកគេ
(al-Quran 9:127)

~munāfiq នឹងក្រឡេកមើលគ្នាទៅវិញទៅមករួចក៏និយាយថាតើមាននរណាម្នាក់មើលឃើញពួកអ្នក ដែរឬទេ? បន្ទាប់មកពួកគេក៏បានចាកចេញ។
(al-Quran 9:127)

~munāfiq នឹងស្បថថាបើពួកគេមានលទ្ធភាពពួកគេនឹងចេញទៅធ្វើសង្គ្រាមជាមួយនឹងអីស្លាមតែពួកគេកំពុងតែបំផ្លាញខ្លួនឯងដោយភាពពុតត្បុត ហើយអល់ឡោះដឹងថាពិតប្រាកដណាស់ ពួកគេជាពួកដែលភូតកុហក។
(al-Quran 9:42)

~munāfiq នឹងស្បថថាពួកគេមកអំពីក្រុមមានជំនឿតែ ពួកគេមិនមែន
(al-Quran 9:56)

~munāfiq នឹងសុំដោយមិនចង់ចូលរួមសមរភូមិ ដោយសា មិនចង់ប្រឈមមុខនឹង

Caption

គ្រោះថ្នាក់
(al-Quran 9:49)

~munāfiq នឹងគ្មានអ្នកគាំពារ និងអ្នកជួយនោះទេក្នុងលោកិយនេះ
(al-Quran 9:74)

~munāfiq នឹងស្លាប់ដោយគ្មានជំនឿនឹងមូលហេតុ
ទ្រព្យសម្បត្តិរបស់ពួកគេ និងកូនចៅរបស់ពួកគេ ហើយតាម ពិតប្រការទាំងនេះជាទណ្ឌកម្មមួយសំរាប់ពួកគេ
(al-Quran 9:55)

~munāfiq នឹងឈឺចាប់នៅពេលសំណាងល្អធ្លាក់ទៅលើពួកគេ
(al-Quran 9:50)

~munāfiq នឹងសប្បាយរីករាយនៅពេលសំណាងអាក្រក់ ធ្លាក់ទៅលើអីស្លាមដោយពួកគេនិយាយថាពួកយើងបានដឹង រឿងនេះមុនទើបពួកយើងដកខ្លួនចេញពីពួកអ្នក
(al-Quran 9:50)

~munāfiq នឹងអង្គុយជាមួយនឹងពួកដែលឃើតយ៉ាវ
(al-Quran 9:83)

~munāfiq នឹងឆ្លើយដោះសានៅពេលដែលអីស្លាម
បានវិលត្រឡប់ទៅកាន់ពួកគេវិញបន្ទាប់ពីចប់សង្គ្រាម
(al-Quran 9:94)

~munāfiq នឹងត្រូវគេបញ្ជូនទៅជួបអល់ឡោះជាម្ចាស់ដែលដឹងប្រការអាថ៌កំបាំង និងប្រការលាតត្រដាង បន្ទាប់មកអល់ឡោះនឹងបញ្ជាក់ប្រាប់ពួកគេនូវអ្វីដែលពួកគេបានប្រព្រឹត្ត។
Caption
(al-Quran 9:94)

~munāfiq នឹងមានគ្រោះអាក្រក់កើតមានចំពោះពួកគេ
ដោយសាពួកគេបានរង់ចាំមើលអំពីគ្រោះថ្នាក់ដែលនឹងកើតឡើងទៅលើអីស្លាម
(al-Quran 9:98)

~munāfiq នឹងសួរអំពីអាយ៉ាត់ និងសើចចំអកទៅលើ អាយ៉ាត់ដែលបានបញ្ចុះមកថា៖ តើមានអ្នកណាក្នុងចំណោមពួកអ្នកដែលវានេះធ្វើឱ្យគេកាន់តែមានជំនឿនោះ? គឺពួកគេមានជម្ងឺសង្ស័យ
(al-Quran 9:124)

~munāfiq ឬ kafir ដែលប្រឆាំងនឹងអល់ឡោះជាម្ចាស់ និងអ្នកនាំសារនឹងចូលឋាននរកជាអមតៈ ហើយនេះគឺជាការ អាម៉ាស់ដ៏ធំបំផុត ។

(al-Quran 9:63)

~munāfiq ក៏ដូចពួក kāfir ដែរដោយពួកគេនឹងមានភ័ព្វសំណាង កូនចៅ ទ្រព្យសម្បត្តិ និងកម្លាំងពលំខ្លាំងក្លា តែអំពើទាំងឡាយរបស់ពួកគេបានរលាយសាបសូន្យទាំងក្នុងលោកិយ និងបរលោក

(al-Quran 9:69)

~munāfiq ខ្លាចអីស្លាមងាកចេញពីពួកគេ ដូចនេះពួកគេបានស្បថនឹងអល់ឡោះដើម្បីយកចិត្តអីស្លាមបន្ទាប់ពី
វិលត្រឡប់ក្រោយចប់សង្គ្រាមរួច ដូចនេះងាកចេញពីពួកគេចុះ

(al-Quran 9:95)

~munāfiq ព្រួយបារម្ភខ្លាចជំពូកណាមួយត្រូវគេបញ្ចុះ មកលើពួកគេ ដើម្បីលាតត្រដាងអំពីអ្វីដែលមាននៅក្នុង
ចិត្តរបស់ពួកគេ ហើយអល់ឡោះជាម្ចាស់នឹងលាតត្រដាង
នូវអ្វីដែលពួកគេកំពុងព្រួយបារម្ភនោះ។

(al-Quran 9:64)

~munāfiq បើពួកគេជាជនមានជំនឿពួកគេត្រូវផ្គាប់ចិត្ត អល់ឡោះ និងអ្នកនាំសារ

(al-Quran 9:62)

~munāfiq បើមានអ្នកសុំអភ័យទោសឱ្យពួកគេ ឬមិនសុំអភ័យទោសឱ្យពួកគេក៏ដោយក៏អល់ឡោះមិនអភ័យទោសឱ្យដែរ

(al-Quran 9:80)

~munāfiq បើមានអ្នកសុំអភ័យទោសឱ្យពួកគេចំនួន 70 ដងក៏អល់ឡោះជាម្ចាស់មិនទទួលយក ឬអភ័យទោសឲ្យពួកគេនោះដែរដោយសាពួកគេគ្មានជំនឿលើអល់ឡោះ និងអ្នក នាំសារ

(al-Quran 9:80)

~munāfiq បរិច្ចាគដោយមិនពេញចិត្ត ឬមិនបរិច្ចាគនោះទេ

(al-Quran 9:54)

~munāfiq ជាអ្នកមានៗរបស់ពួកគេបានសុំមិនចេញទៅប្រយុទ្ធ

(al-Quran 9:86)

~munāfiq ត្រូវបានអល់ឡោះជាម្ចាស់សន្យាសំរាប់ពួកគេ នូវនរក Jahannam និងស្ថិតនៅទីនោះជាអមតៈ

(al-Quran 9:68)

~munāfiq ត្រូវបានអល់ឡោះជាម្ចាស់ដាក់បណ្តាសា ពួកគេដូចនេះពួកគេនឹងទទួលទារុណកម្មជារៀងរហូត

(al-Quran 9:68)

~munāfiq ត្រូវបានអល់ឡោះជាម្ចាស់ដាក់ភាពពុតត្បុតទៅក្នុងចិត្តរបស់ពួកគេ ហើយវាជាទណ្ឌកម្មមួយដោយសារ ពួកគេបានក្បត់នឹងអល់ឡោះនូវអ្វីដែលពួកគេបានសន្យាជាមួយទ្រង់ និងដោយសារតែអ្វីដែលពួកគេធ្លាប់ភូតកុហកនោះ។

(al-Quran 9:75-77)

~munāfiq ត្រូវបានអល់ឡោះជាម្ចាស់ខឹង និងដាក់បណ្តាសា ហើយរៀបចំឋាននរកសំរាប់ពួកគេដោយសាតែពួកគេ បានគិតអាក្រក់ចំពោះព្រះ

(al-Quran 48:6)

~munāfiq ត្រូវបានអល់ឡោះជាម្ចាស់មិនអនុគ្រោះដល់ ពួកគេទេ ទោះបីអីស្លាមអនុគ្រោះដោយការស្បថរបស់ពួកគេក៏ដោយ
(al-Quran 9:96)

~munāfiq ត្រូវបានអល់ឡោះជាម្ចាស់ពន្យាពេលដើម្បីធ្វើការសំរេចថាតើត្រូវធ្វើទារុណកម្ម ឬទទួលយកសារភាពកំហុសរបស់ពួកគេ ពីព្រោះថាអល់ឡោះមហាដឹងមហាគតិបណ្ឌិត។
(al-Quran 9:106)

~munāfiq ត្រូវបានអាយ៉ាត់បញ្ជាឲ្យពួកគេមានជំនឿ និងចេញទៅប្រយុទ្ធជាមួយអ្នកនាំសារ តែអ្នកមាននៃពួកគេបាន សុំមិនចូលរួមដោយទុកពួកគេជាមួយអ្នកអង្គុយ
(al-Quran 9:86)

~munāfiq ត្រូវដឹងថាអល់ឡោះជាម្ចាស់ និងអ្នកនាំសារនឹងមើលឃើញអំពើៗរបស់ពួកគេ
(al-Quran 9:94)

Caption
~munāfiq គិតអាក្រក់ចំពោះអល់ឡោះជាម្ចាស់
(al-Quran 48:6)

~munāfiq ពួកគេស្បថនឹងអល់ឡោះនៅចំពោះមុខពួកអ្នកមានជំនឿដើម្បីផ្គាប់ចិត្តអ្នកមានជំនឿប៉ុណ្ណោះ
តែអល់ឡោះ និងអ្នកនាំសាររបស់ទ្រង់ទេដែលសក្ដិសមបំផុតសម្រាប់ពួកគេផ្គាប់ចិត្ត
(al-Quran 9:62)

~munāfiq ធ្វើការស្បថដើម្បីអីស្លាមអនុគ្រោះដល់ពួកគេ
(al-Quran 9:96)

~munāfiq និង kāfir ត្រូវបានអីស្លាមបញ្ជាឲ្យតស៊ូប្រឆាំងនឹងពួកគេដោយត្រូវប្រឆាំងឱ្យបានខ្លាំងក្លាបំផុត

(al-Quran 9:73)

~munāfiq ចូលចិត្តធ្វើអ្វីដែលខ្លួនឯងមិនអាចសំរេចបាន

(al-Quran 9:74)

~munāfiq មិនអាចធ្វើអ្វីបានមួយនោះទេ ដូចនេះដោយសាមានការប្រោសប្រទានអំពីអល់ឡោះជាម្ចាស់ និងការផ្តល់ឲ្យអំពីអ្នកនាំសារទៅលើពួកគេប៉ុណ្ណោះ

(al-Quran 9:74)

~munāfiq មិនត្រូវអនុញ្ញាតិពួកគេឲ្យចូលរួមក្នុងសមរភូមិ នោះទេបើពួកគេបានបដិសេធហើយនោះ

(al-Quran 9:83)

~munāfiq មិនចូលរួមប្រយុទ្ធជាមួយអីស្លាមនោះទេដោយពួកគេចូលចិត្តអង្គុយ និងរង់ចាំ

Caption

ដោយខ្លាចប្រឈមនឹងគ្រោះថ្នាក់

(al-Quran 9:83)

~munāfiq មិនដឹងថាអល់ឡោះជាម្ចាស់ដឹងអំពីអាថ៌កំបាំង និងការខ្សឹបខ្សៀវរបស់គេនោះទេ

(al-Quran 9:78)

~munāfiq ប្រសិនបើពួកគេសារភាពកំហុសនោះ វាជាការប្រសើរបំផុត តែបើពួកគេបែរចេញវិញ អល់ឡោះនឹងធ្វើទារុណកម្ម ពួកគេនូវទារុណកម្មមួយដ៏ឈឺចាប់ទាំងនៅក្នុងលោកិយ និងថ្ងៃ បរលោក។



(al-Quran 9:74)

~munāfiq សំណង់គ្រឹះរបស់ពួកគេដូចជាម៉ាស្ជិទដែលពួកគេបានសាងសង់នោះស្ថិតក្នុង
ភាពស្រពេចស្រពិលនៅក្នុងចិត្តរបស់ ពួកគេរហូតដល់ស្លាប់
(al-Quran 9:110)

~munāfiq បានសុំ និងសន្យាជាមួយអល់ឡោះជាម្ចាស់ថា៖ ប្រសិនបើទ្រង់បានផ្ដល់ការ
ប្រោសប្រទានលាភសក្ការៈរបស់ទ្រង់ដល់ពួកយើងនោះ ពួកយើងពិតជាជឿ លើទ្រង់
ហើយពួកយើងពិតជានឹងស្ថិតក្នុងចំណោមអ្នកដែលសាង អំពើល្អជាមិនខាន។
(al-Quran 9:75)

~munāfiq បានស្បថនឹងអល់ឡោះថាពួកគេមិន បាននិយាយអ្វីឡើយ តែតាមពិតពួកគេ
បាននិយាយនូវពាក្យសំដី ដែលគ្មានជំនឿ
(al-Quran 9:74)

~munāfiq បានធ្លាក់ទៅក្នុងការគ្រោះថ្នាក់រួចទៅហើយ ដោយសាការពុតត្បុតរបស់ពួកគេ
(al-Quran 9:49)

Caption
~munāfiq បានចាត់ទុកថាការបរិច្ចាគនៅក្នុងមាគ៌ា
អល់ឡោះជាម្ចាស់ជាការខាតបង់ ដូចជាពួកអារ៉ាប់ជនបទ (الْأَعْرَابِ) ជាដើម
(al-Quran 9:98)

~Islam ត្រូវងាកចេញពីជន munāfiq ដោយសាពួកគេ
កខ្វក់
(al-Quran 9:95)

~Islam មិនអនុញ្ញាតិឲ្យពួក munāfiq អវត្តមាននោះទេដូចជាក្នុងសង្គ្រាមជាដើម
លើកលែងតែបានដឹងថាពួកគេ ជាជន munāfiq
(al-Quran 9:43)

~Islam មិនអនុញ្ញាតិសឡាត Janazah សំរាប់ជន munāfiq នោះទេដោយសាពួកគេគ្មានជំនឿលើ អល់ឡោះជាម្ចាស់ និងអ្នកនាំសារ  ហើយស្លាប់ខណៈជា faasiq ថែមទៀតផង
(al-Quran 9:84)

~Islam មិនអនុញ្ញាតិឲ្យឈរនៅលើផ្នូររបស់ជន munāfiq ដើម្បីសុំអភ័យទោសឱ្យពួកគេនោះទេ
(al-Quran 9:84)

~Islam មិនត្រូវភ្ញាក់ផ្អើលនឹង munāfiq ចំពោះទ្រព្យសម្បត្តិ និងកូនចៅរបស់ពួកគេនោះទេព្រោះវាជាទណ្ឌកម្មសំរាប់ពួកគេដើម្បីឲ្យពួកគេស្លាប់ទៅជាជនអជំនឿ
(al-Quran 9:55, 85)

~Islam មិនត្រូវជឿ ឬស្តាប់លើពាក្យដោះសារបស់ពួក munāfiq នោះទេពីព្រោះអល់ឡោះជាម្ចាស់បានប្រាប់អំពី ការភូតកុហករបស់ពួកគេរួចមកហើយ
(al-Quran 9:94)

~Islam ត្រូវណែនាំពួក munāfiq ឲ្យប្រព្រឹត្តអំពើល្អដើម្បី
អល់ឡោះជាម្ចាស់ អ្នកនាំសារ អ្នក mu'min នឹងមើលឃើញនៅទង្វើរបស់ពួកគេ
(al-Quran 9:105)

~A'raab ពួកអារ៉ាប់ជនបទ (ٱلْأَعْرَابُ) មួយចំនួនដែលរស់នៅជុំវិញអីស្លាមពួកគេជាជន munāfiq
(al-Quran 9:101)

~A'raab ពួកអារ៉ាប់ជនបទ (ٱلْأَعْرَابُ) ពួកគេមានពុតត្បុត និងគ្មានជំនឿខ្លាំងជាងគេ ហើយពួកគេថែមទាំងមិនដឹងពីព្រំដែនច្បាប់ ដែលអល់ឡោះបានបញ្ចុះមកឱ្យអ្នកនាំសាររបស់ទ្រង់ទៀតផង
(al-Quran 9:97)

~ប្រជាជនដែលរស់នៅក្នុងទីក្រុង Madina ខ្លះនៅមាន ភាពរឹងរូសស្ថិតជាជន munāfiq នៅឡើយ តែអីស្លាមមិនស្គាល់ពួកគេទេ ហើយអល់ឡោះជាម្ចាស់ស្គាល់ពួកគេ
(al-Quran 9:101)

~ចូរនិយាយទៅពួក munāfiq ឬពួកចំអកទៅលើការ បរាជ័យរបស់អីស្លាមថា៖

»អ្វីទាំងនោះមិនអាចធ្លាក់មកលើ ពួកយើងឡើយ លើកលែងតែអ្វីដែលអល់ឡោះបានចារកំណត់ សម្រាប់ពួកយើងប៉ុណ្ណោះ ព្រោះទ្រង់ជាអ្នកគាំពារពួកយើង។ ហើយចំពោះអល់ឡោះតែមួយគត់ដែលបណ្តាអ្នកមានជំនឿត្រូវ ប្រគល់ការទុកចិត្ត។
»តើពួកអ្នករង់ចាំយើងក្រៅ ពីផលមួយនៃផលល្អទាំងពីរ(ស្លាប់ស្ហាហ៊ីទ ឬជ័យជំនះ)នេះឬ? ហើយពួកយើងចាំមើលពួកអ្នកថា អល់ឡោះនឹងធ្វើឱ្យពួកអ្នក ឈឺចាប់ដោយទណ្ឌកម្មពីទ្រង់ផ្ទាល់ ឬដោយដៃផ្ទាល់របស់ពួកយើង។ ដូច្នេះចូរពួកអ្នករង់ចាំចុះ ពិតប្រាកដណាស់ពួកយើងក៏រង់ចាំជាមួយ ពួកអ្នកដែរ។
(al-Quran 9:51-52)

Caption

•munāfiq ត្រូវបានអ្នកប្រាជ្ញសម័យបច្ចុប្បន្នពណ៌នាថា៖

1.ជាជនដែលធ្វើពុតចំពោះអល់ឡោះជាម្ចាស់ដោយគោលជំនឿរបស់ពួកគេមានការសង្ស័យ ឬអជំនឿ ។

ហើយមានមនុស្សមួយចំនួន(ពួកពុតត្បុត)និយាយថា: ពួកយើងបានជឿលើអល់ឡោះនិងថ្ងៃបរលោក ខណ:ដែលពួកគេមិនមែនជាអ្នកមានជំនឿ។ ហើយនៅពេលដែលពួកគេបានជួបនឹងបណ្តាអ្នកមានជំនឿពួកគេបាននិយាយអះអាងថា:ពួកយើងបានជឿដូចពួកអ្នកដែរ។ តែនៅពេលដែលពួកគេបានវិលត្រឡប់ទៅជួបនឹងមេដឹកនាំរបស់ពួកគេវិញពួកគេបាន

និយាយថា:ពិតប្រាកដណាស់ពួកយើងនៅជាមួយពួកអ្នក(ប្រកាន់ជំនឿដូចពួកអ្នកដែរ) តាមការពិតពួក យើងគ្រាន់តែចំអកលេងសើចប៉ុណ្ណោះ។

(al-Quran 2:8,14)

2.ជាជនដែលធ្វើពុតជាមានជំនឿដោយពួកគេប្រព្រឹត្តបាបកម្ម ជឿលើប្រការអាថ៌កំបាំង ដូចជាថ្ងៃជុំនុំជំរះ ឋានសួគ៌ ឋាននរកតែមានការសង្ស័យ និងមិនប្រាកដ ហើយពួកគេបាន ប្រកាសថាពួកគេមានជំនឿ និងខ្លាចព្រះ ។

3.ជាជនដែលធ្វើពុតចំពោះអ្នកដទៃដោយពួកគេមានមុខ 2 អណ្តាត 2 ដោយពួកគេប្រព្រឹត្ត ល្អនៅចំពោះមុខ តែនៅពីក្រោយពួកគេបានផ្តល់ទុក្ខទោស និងផលប៉ះពាល់យ៉ាងប្រាកដ ។

•munāfiq នាសម័យរ៉ស៊ូលុលឡោះ និងសកម្មភាពៗរបស់ពួកគេ

1.មិនចូលរួម និងគេចវេះអំពីជួរកងទ័ពអីស្លាម

2.សើចចំអកចំពោះរ៉ស៊ូលុលឡោះ និងអ្នកអីស្លាម

Caption

3.ប៉ុនប៉ងសំលាប់រ៉ស៊ូលុលឡោះ

4.និយាយបង្កាច់បង្ខូចទៅលើប្រពន្ធរ៉ស៊ូលុលឡោះ (ដូចជា A'isha ជាដើម)

5.ប៉ុនប៉ងបំបែកបំបាក់សង្គមអីស្លាម

6.យកលែសក្លែងក្លាយដើម្បីគេចអំពីការធ្វើ Jihad

7.ធ្វើឲ្យខូចសីលធម៌កងទ័ពអីស្លាម

8.និយាយវាយប្រហារទៅលើលក្ខណះសម្បត្តិរបស់រ៉ស៊ូលុលឡោះ និងជនមូស្លីម

9.សហការនឹងជនអជំនឿដើម្បីប្រឆាំងនឹងអីស្លាម

10.ធ្វើវេទមន្តទៅលើរ៉ស៊ូលុលឡោះ



11.ធ្វើការបំពានដោយចេតនាទៅលើបទបញ្ញាណាព្វី

11.ធ្វើការបំពានដោយចេតនាទៅលើបទបញ្ញាណាព្វី

12.ធ្វើល្បិចដើម្បីអនុវត្តផែនការឲអាក្រក់របស់ពួកគេ

•munāfiq នៅក្នុងគម្ពីរ

~munāfiq ត្រូវបានគម្ពីរបរិយាយសំដៅទៅលើពួកគេ មានជាច្រើនអាយ៉ាត់ ហើយអ្នក mu’min ក៏បានត្រូវគេណែនាំឲ្យប្រុងប្រយ័ត្នចំពោះពួកគេ ។ ដូច្នេះរាល់អ្នក mu’min ដែលយកគម្ពីរជាមគ្គុទ្ទេសក៏ ឬដើរលើផ្លូវដែលអល់ឡោះបានណែនាំត្រូវប្រុងប្រយ័ត្ន និងត្រូវស្គាល់អំពីលក្ខណៈរបស់ពួកគេ

~mu’min ដែលដើរតាមការណែនាំរបស់គម្ពីរ និងស៊ុណ្ណះ នឹងជួបប្រទះជន munāfiq ដែលពួកគេត្រូវបានពណ៌នា ដូចខាងក្រោម៖

~munāfiq ត្រូវបានពណ៌នាក្នុងគម្ពីរថាជាមនុស្សប្រភេទ៖

Caption

1.Riya’ (to be seen of men)
(al-Quran 4:142)
2.Treacherous
(al-Quran 59:11-12)
3.Excessive In Disagreements
4.Breaking Promises
5.Lazy In Performing Ibaadah
(al-Quran 4:142)
6.Telling Lies
(al-Quran 2:14)
7.Not As Much Of Doing Zikr
(al-Quran 4:142)
8.Hastening To End Solat
9.Condemning The Obedient and Righteous People
(al-Quran 9:79)

10.Making Fun of Al-Qur'an, As-Sunnah and Rasullah SAW
(al-Quran 9:65-66, 124)
11.False Swearing (Perjury)
(al-Quran 63:2, 58:16, 4:62, 9:56)
12.Unwilling To Infaq (spending wealth in the way of Allah or sadaqah)
13.Not Paying Attention To The Fate Of The Muslims
(al-Quran 9:94)
14.Keen On Spreading False News
(al-Quran 33:60)
15.Denying The Taqdeer (Divine Decree or destiny)
(al-Quran 33:17)
16.Criticizing The Honor Of The Righteous People
(al-Quran 33:19)
17.Always Avoiding Salat In Jama'ah (Congregation)
18.Committing Corruptions On Earth With An Excuse Of Doing Good
(al-Quran 2:11-12)
19.No Conformity
20.Fearing Any Incident Or Event
(al-Quran 33:17)
21.Being Evasive By Fabricating Illness
(al-Quran 9:49)
22.Encouraging Munkar and Preventing Ma'ruf
Caption
(al-Quran 9:67, 4:61, 59:16)
23.Miserly (Bakhil)
24.Forgetting Allah
25.Denying The Promise Of Allah and His Rasul
(al-Quran 33:12)
26.Arrogant In Speech
27.Not Understanding Ad-Deen (Islam)
(al-Quran 9:126)
28.Hiding From People And Fighting Allah With Sins
(al-Quran 4:108)
29.Happy With The Calamities That Befall The Believers and Envious With Their Happiness
30.Stupid person but not knowing
(al-Quran 2:13)

•munāfiq និងការកំចាត់ពួកគេ

»The Qur’an gives us the guidelines of how to tackle these munafiq human beings:

1.មិនត្រូវគោរព ឬធ្វើតាម និងយកពួកគេជាមេដឹកនាំឲ្យសោះ

(al-Quran 33:1)

2.ត្រូវរឹងមាំចំពោះពួកគេរហូតដល់ទារុណកម្មរបស់អល់ឡោះជាម្ចាស់មកដល់

(al-Quran 33:73)

3.បដិសេធពួកគេដោយមិនគោរពតាម និងចាប់អារម្មណ៍នៃការធ្វើបាបរបស់ពួកគេ

(al-Quran 33:48)

4.ត្រូវសហការគ្នាក្នុងការប្រយុទ្ធប្រឆាំងនឹងពួកគេ

(al-Quran 33:73)

5.ត្រូវតឹងរឹងចំពោះពួកគេឲ្យបានខ្លាំងក្លា

Caption

(al-Quran 66:9)

•kāfir និងអ្នកពុតត្បុត

~ក្រុមមនុស្សមួយចំនួន ឬពួកពុតត្បុតដែលនិយាយតែមាត់ ថាពួកគេមានជំនឿលើអល់ឡោះនិងថ្ងៃបរលោកតែពួកគេមិនមានជំនឿនោះពួកគេ៖

»ពួកគេកំពុងតែបោកបញ្ឆោតខ្លួនឯងតែពួកគេមិនដឹងខ្លួនឡើយ

»ក្នុងចិត្តរបស់ពួកគេគឺមានជម្ងឺ(មន្ទិលសង្ស័យ)។ ដូច្នេះ អល់ឡោះបានបន្ថែមជម្ងឺនេះលើពួកគេថែមទៀត

»ពួកគេនឹងទទួលទារុណកម្មយ៉ាងឈឺចាប់ដោយសារតែ ពួកគេបានភូតកុហក

»នៅពេលដែលមានគេនិយាយទៅកាន់ពួកគេថាៈ ចូរពួកអ្នកកុំបង្កវិនាសកម្មនៅលើផែនដីនេះ ពួកគេបានឆ្លើយថាៈ តាមពិតពួកយើងគ្រាន់តែជាអ្នកផ្សះផ្សាប៉ុណ្ណោះ។ ពិតប្រាកដណាស់ ពួកគេគឺជាអ្នកដែលបង្កវិនាសកម្ម ក៏ប៉ុន្តែពួកគេមិនដឹងខ្លួនឡើយ។

» ហើយនៅពេលដែលមានគេនិយាយទៅកាន់ពួកគេថាៈ ចូរពួកអ្នកជឿដូចអ្វីដែលមនុស្ស(អ្នកមានជំនឿ)បានជឿ។ ពួកគេបានតបថាៈ តើឱ្យពួកយើងជឿដូចមនុស្សឆោតល្ងង់យ៉ាងដូចម្ដេច ទៅ? ចូរដឹងថាៈ ពិតប្រាកដណាស់ ពួកគេគឺជាពួកដែលឆោតល្ងង់ ក៏ប៉ុន្តែពួកគេមិនដឹងឡើយ។

»នៅពេលដែលពួកគេបានជួបនឹងបណ្ដាអ្នកមានជំនឿពួកគេបាននិយាយអះអាងថាៈពួកយើងបានជឿដូចពួកអ្នកដែរ។ តែនៅពេលដែលពួកគេបានវិលត្រឡប់ទៅជួបនឹងមេដឹកនាំរបស់ពួកគេវិញពួកគេបាននិយាយថាៈពិតប្រាកដណាស់ពួកយើងនៅជាមួយពួកអ្នក(ប្រកាន់ជំនឿដូចពួកអ្នកដែរ) តាមការពិតពួក យើងគ្រាន់តែចំអកលេងសើចប៉ុណ្ណោះ។

»ពួកគេត្រូវបានអល់ឡោះចំអកលេងសើចចំពោះពួកគេវិញ ហើយទ្រង់ បន្ដឱ្យពួកគេ

Caption

ស្ថិតនៅក្នុងភាពវង្វេងរបស់ពួកគេ ដោយពួកគេស្រពេចស្រពិល។

»ពួកដែលបានយកការចង្អុលបង្ហាញ មកប្ដូរយកភាពវង្វេង ហើយការធ្វើជំនួញរបស់ពួកគេបែបនេះគ្មាន ចំណេញអ្វីឡើយ ហើយពួកគេក៏មិនមែនជាពួកដែលបានទទួល ការចង្អុលបង្ហាញដែរ។

»ពួកគេត្រូវបានគេប្រៀបធៀបដូចនឹងអ្នកដែលបានបង្កាត់ភ្លើង ហើយនៅពេលដែលភ្លើងបានបំភ្លឺនូវអ្វីៗដែលនៅជុំវិញគេ អល់ឡោះបានបំបាត់ពន្លឺរបស់ពួកគេទៅវិញ ហើយទុកឱ្យពួកគេស្ថិតនៅក្នុងភាពងងឹតដោយពួកគេមើលមិនឃើញអ្វីឡើយ។ ដូច្នេះពួកគេថ្លង់ គ និងងងឹត ដោយពួកគេមិនអាចវិល ត្រឡប់(ទៅរកមាគ៌ាត្រឹមត្រូវ)វិញបានឡើយ។

»ពួកគេដូចជាភ្លៀងធ្លាក់យ៉ាងខ្លាំងពីលើមេឃពោរពេញទៅ ដោយភាពងងឹត ផ្គររន្ទះ និងផ្លេកបន្ទោរ។ ពួកគេក៏យកម្រាមដៃ ញ៉ុករន្ធត្រចៀករបស់ពួកគេ ដើម្បីការពារពីសំឡេងរន្ទះដោយភ័យ ខ្លាចពីការស្លាប់។ ផ្លេកបន្ទោរជិតតែនឹងឆាបឆក់ក្រសែភ្នែករបស់ពួកគេ។ រាល់ពេលដែលផ្លេកបន្ទោរបានជះពន្លឺដល់ពួកគេ ពួកគេបានបន្ត ដំណើរទៅមុខ តែនៅពេលដែលភាពងងឹតបានគ្របដណ្តប់ទៅ លើពួកគេ ពួកគេឈរស្ងៀមនៅមួយកន្លែង។ ប្រសិនបើអល់ឡោះមានចេតនា ទ្រង់ពិតជានឹងដកយកការស្តាប់ឮ និងការមើលឃើញរបស់ពួកគេ។ ពិតប្រាកដណាស់អល់ឡោះមានអានុភាពលើអ្វីៗ ទាំងអស់។
(al-Quran 2:8-20)

~មនុស្សមួយចំនួននៅពេលគេស្តាប់ការសូត្រគម្ពីរអល់ឡោះជាម្ចាស់បានដាក់រនាំងបាំងនៅលើចិត្តរបស់ពួក គេដើម្បីកុំឱ្យពួកគេយល់វា ហើយនៅក្នុងត្រចៀករបស់គេមានធ្លុកចុក។ ហើយទោះបីជាពួកគេមើលឃើញគ្រប់អាយ៉ាត់ទាំងអស់ ក៏ ពួកគេមិនជឿនឹងវាដែរ។ ទោះបីពួកគេបានមកដល់អ្នកក៏ដោយ ក៏ ពួកគេនឹងប្រកែកជាមួយអ្នកដដែល។
(al-Quran 6:25)
Caption

~munāfiq ដូចពួក kafir នៅសម័យមុនៗពួកគេដែរដោយពួកគេមានកម្លាំងពលំខ្លាំងក្លា និងមានទ្រព្យសម្បត្តិ និងកូន ចៅច្រើនជាងទៅទៀត ហើយបានរីករាយនឹងភ័ព្វ-សំណាងរបស់ពួកគេ។ រីឯពួក munāfiq ក៏បានរីករាយនឹងភ័ព្វសំណាងដូចដែលពួកគ្មានជំនឿមុនៗបានរីករាយនឹងភ័ព្វសំណាង របស់ពួកគេដែរ។ ហើយពួក munāfiq បាន និយាយចំអកដូចពួក kafir បាននិយាយចំអកដែរ។ ពួកទាំងនោះ អំពើទាំងឡាយរបស់ពួកគេបាន រលាយអស់ទាំងនៅលើលោកិយ និងថ្ងៃបរលោក។ ហើយពួកទាំង នោះគឺជាពួកដែលខាតបង់។
(al-Quran 9:69)

~munāfiq និង mu’min នៅពេលមានអាយ៉ាត់ឲបញ្ចុះមកគឺថា៖

1.mu’min ពួកគេកាន់តែមានជំនឿ ហើយសប្បាយរីករាយ

2.munāfiq ពួកគេកាន់តែគ្មានជំនឿលើភាពគ្មានជំនឿថែមទៀតដោយសារតែពួកគេមានជម្ងឺពុតត្បុត ហើយនឹងស្លាប់ក្នុងលក្ខណៈមួយជា kāfir

(al-Quran 9:124-125)

•Dua ប្រឆាំងនឹង munāfiq

1.

أَللَّهُمَّ رَبَّ السَّمواتِ السَّبْعِ وَرَبَّ الْعَرْشِ الْعَظِيْمِ, كُنْ لِي جارَاً مِنْ (فُلانِ بْنِ فُلاَنِ),وَأَحْزَابِهِ مِنْ خَلاَئِقِكَ أَنْ يَفْرُطَ عَلَيَّ أَحَدٌ مِنْهُمْ أَوْ يَطْغَى, عَزَّ جارُكَ وَجَلَّ ثَنَاؤُكَ, وَ لاَ إِلَهَ إِلاَّ أَنْتَ

Allaahumma Rabbas-samaawaatis-sab’i, wa Rabbal-‘Arshil-‘Adheem, kun lee jaaran min [here you mention the person’s name], wa ‘ahzaabihi min khalaa’iqika, ‘an yafruta ‘alayya ‘ahadun minhum ‘aw yatghaa, ‘azzajaaruka, wajalla thanaa’uka, wa laa ‘ilaaha ‘illaa ‘Anta
(Al-Adab Al-Mufrad 707)
(Hisn al-Muslim 129)

2.

اللَّهُمَّ إِنِّي أَعُوذُ بِكَ مِنْ جَارِ السُّوءِ فِي دَارِ الْمُقَامِ، فَإِنَّ جَارَ الدُّنْيَا يَتَحَوَّلُ.

(Al-Adab Al-Mufrad 117)

3.

اللَّهُمَّ إِنِّي أَعُوذُ بِكَ مِنَ الشِّقَاقِ وَالنِّفَاقِ وَسُوءِ الأَخْلاَقِ

Allahumma inni a'udhu bika minash-shiqaqi wan-nifaqi, wa suw'il-akhlaq
(Sunan an-Nasa'i 5471 Da'if)

4.

اللَّهُمَّ إنّي أعُوذُ بِكَ مِنْ يَوْمِ السُّوءِ، وَمِنْ لَيْلَةِ السُّوءِ، وَمِنْ سَاعَةِ السُّوءِ، وَمِنْ صَاحِبِ السُّوءِ، وَمِنْ جَارِ السُّوءِ في دَارِ الْمُقامَةِ

(Hasan by al-Albani in Silsilatus Saheeha 1443, and Sahih al-Jami 1/278, 1299)



Caption